ះ សញ្ញានេះឈ្មោះ វិសជ៌នី ឬ រះមុខ (បានឃើញ
រួចហើយ) សម្រាប់ប្រើដាក់មុខជិតួសខ្យល់ ហ សំដីដាច់
រួចក្នុងពាក្យ នេះ នោះ សេះ រទេះ សង្គ្រោះ បំពោះ ។ ល ។

មួយទៀត មានពាក្យជាច្រើនយកអក្សរលើសពីអក្សរ
ត្រវប្រកប ហើយប្រើតែជើងនៅក្រោមតួប្រកប ប៉ុន្តែមិនជាផិត
ប្រយោជន៍ទេ នាំឲ្យសំដីដាច់ដែរ តែក្នុងការមើល ត្រវប្រកប
តែនឹងតួព្យញ្ជនៈលើក៏បានហើយ ។ ឯពាក្យសរសេរបែបនេះ
ច្រើនតែកំណើតពីបាលី ឬសំស្រ្កឹត ឬពីភាសាដទៃ ឧបមាដូច
ជាពាក្យ (ចិត្ត) ចៃចេត្រ ខេត្ត ប្រៃសុក្រ មនុស្ស សិស្ស
ពេទ្យ រាស្ត្រ បុណ្យ ភូមិសាស្ត្រ វត្ត (វាត់) អារក្ស (អារាក់)
យក្ស (យាក់) ព្រះភក្ត្រ ទ្រព្យ (ទ្រាព់) សម្បត្តិ (សម្បាត់)
បញ្ញត្តិ (បញ្ញាត់) ។ល។

———•———

# ១.– ខ្ញុំទៅសាលារៀន

ខ្ញុំអាយុប្រាំពីរឆ្នាំ ខ្ញុំធំហើយ ខ្ញុំមិនលេងឥតគំនិតដូចកាលខ្ញុំនៅពីតូចទៀតឡើយ ។ ខ្ញុំទៅសាលារៀន ខ្ញុំរៀនមើល រៀនសរសេរ រៀនរាប់លេខ រៀនគូរហើយនឹងរៀនបំណេះឯទៀតៗដ៏ច្រើនផង ។ ខ្ញុំខំរៀនឲ្យបានចេះឆាប់ ឲ្យបានអក្សរល្អ ហើយនឹងនិយាយត្រឹមត្រូវផង ឲ្យគ្រូខ្ញុំនិងឪពុកម្ដាយខ្ញុំសប្បាយចិត្ត ។

— • —

ពាក្យពន្យល់ៈ *គំនិត = គិតគូរល្អអាក្រក់ខុសត្រូវ ។ បំណេះ = ការដែលរៀនឲ្យចេះដឹង ។*

ពាក្យសួរៈ *អ្នកអាយុប៉ុន្មាន? ។ អ្នកមករៀនប៉ុន្មានឆ្នាំហើយ? ។ អ្នករៀនអ្វីខ្លះ? ។ អ្នករៀនយ៉ាងដូចម្ដេច? ។*

អក្សរផ្ចង់ៈ *វាខំរៀន វាសរសេរអក្សរល្អ ។*

## ៦.– រៀនមើលសៀវភៅ

livre

គ្រូបង្គាប់ ឱ្យមើលសៀវភៅ ។ ឱ្យក្រោកឡើងកាន់សៀវភៅនៅដៃទាំងសងខាង ដាក់បំងាយល្មមនឹងភ្នែកមើល ប៉ុន្តែមិនឱ្យបាំងមុខវាទេ ។ ឱ្យឈរត្រង់ខ្លួនមិនងើកងោកក្បាល ។ វាមើលសៀវភៅ វាមើលរួយ ៗ ឲ្យច្បាស់ ៗ មួយម៉ាត់ ៗ ។ យើងនៅស្ងៀមស្តាប់វាមើល ហើយយើងយល់សេចក្តីដែលវាមើលនោះ ។ លុះមើលចប់ហើយ គ្រូប្រាប់ឱ្យឱ្យអង្គុយទៅវិញ ។

ពាក្យពន្យល់: សងខាង = ទាំងពីរខាង គឺខាងស្តាំខាងឆ្វេង ។

ងើកងោក = គឺងាកចុះងាកឡើង ទៅខាងនេះម្តង ទៅខាងនោះម្តង ។

អក្សរឡើង: ត្រូវមើលមួយៗ ឲ្យច្បាស់ៗ ។

# ៣.– ប្រដាប់ប្រដារបស់កូនសិស្ស

កូនសិស្សរៀនមើលទន្ទេញក្នុងសៀវភៅមើល រៀនសរសេរក្នុងសៀវភៅសរសេរ ។ ត្រូវមានដងប៉ាកកា ស្លាបប៉ាកកា ទឹកខ្មៅ ។ ដើម្បីនឹងគូសបន្ទាត់ ឬគូរគំនូរលើក្រដាស ត្រូវមានបន្ទាត់ហើយនឹងខ្មៅដៃ ។ ត្រូវមានក្រដាសផ្តិតមួយ សម្រាប់ផ្តិតអក្សរ ឲ្យស្ងួតឆាប់ ។ ត្រូវមានជ័រលុបមួយសម្រាប់លុបអក្សរ ដែលសរសេរខុស ។ ត្រូវមានដីសសម្រាប់សរសេរលើក្តារខៀន ហើយនឹងក្តារថ្មសម្រាប់គិតលេខ ។



ក្មេងដែលមករៀនឯសាលា ត្រូវមានរបស់ទាំងអស់នេះ ត្រូវរក្សាទុកឲ្យគង់កុំឲ្យបាត់ កុំឲ្យឪពុកម្តាយបាយប្រាក់វិញទៀត ។

ពាក្យពន្យល់ : ក្រដាសផ្ចិត = ក្រដាសក្រាស់ជាងក្រដាសសរសេរ ហើយស្រូបទឹកខ្មៅ ។ ជ័រលុប = របស់ធ្វើពីជ័រ សម្រាប់លុបអក្សរខុស ។

ពាក្យសួរ : អ្វីខ្លះដែលជាប្រដាប់ប្រដារបស់កូនសិស្ស ។ សៀវភៅសរសេរ សៀវភៅមើល បន្ទាត់ ខ្មៅដៃ ក្ដារឆ្នួនសម្រាប់ធ្វើអ្វី ? ត្រូវរក្សារបស់នោះឲ្យគង់ឬទេ ? ហេតុអ្វី ? ។

អក្សរផ្ចង់ : កូនសិស្សល្អថែរក្សារបស់ឲ្យគង់ ។

# ៤– សាលារៀននៅភូមិខ្ញុំ

សាលារៀននៅភូមិខ្ញុំមានកន្លែងរៀនបី ។ ក្នុងកន្លែងរៀនមួយៗ មានគ្រូម្នាក់ និងសិស្សច្រើន ។ ថ្នាក់កុមារដ្ឋានដែលខ្ញុំរៀននៅខាងស្ដាំជិតទ្វារដែលចូលទៅ ។

សាលារៀននោះសង់នៅទីដីមួយធំ ។ នៅមុខសាលារៀន មានដើមឈើជាលំអ ហើយនឹងសួនផ្កាមួយ ។ នៅខាងក្រោយ មានទីធ្លាធំមួយ ដែលយើងរៀនវិជ្ជាហាត់ប្រាណ ហើយនឹងលេងក្នុងវេលាឈប់សំរាករៀន ។

ពាក្យពន្យល់ : កុមារដ្ឋាន= ថ្នាក់ក្មេងតូចៗ ដែលទើបនឹងចូលរៀន ។ ឈើជាលំអ= ឈើសម្រាប់ឲ្យល្អមើល ។

ពាក្យសួរ : សាលារៀននៅភូមិអ្នក មានកន្លែងរៀនប៉ុន្មាន? អ្នករៀននៅថ្នាក់ណា? មានអ្វីនៅជុំវិញសាលាអ្នក? ។

អក្សរផ្ចង់ : ក្នុងកន្លែងរៀនមួយ ៗ មានគ្រូម្នាក់ នឹងសិស្សច្រើន ។

# ៤_ កូនសិស្សល្អ

កែវឧស្សាហ៍រៀនណាស់ វាចាំមេរៀនវាទាំងអស់ ហើយវាធ្វើកិច្ចការវាល្អផង នៅក្នុងកន្លែងរៀន វាប្រុងប្រយ័ត្ន ហើយមានកិរិយាសុភាពល្អផង ។ វាចេះគួរសមនឹងគ្រូ ចិត្តល្អនឹងក្មេងដទៃ ហើយស្លូតត្រង់ ចិត្តធ្ងន់ ក្រខឹងផង ។ គេស្រឡាញ់វាទាំងអស់គ្នា ។ កែវជាកូនសិស្សល្អ ខ្ញុំខំយកដំរាប់វា ។



---

<u>ពាក្យពន្យល់</u> : <u>មេរៀន</u> = គឺការដែលគ្រូដាក់ឲ្យរៀន ។ <u>កិច្ចការ</u> = រឿងរ៉ាវដែលគ្រូដាក់ឲ្យធ្វើ ។ <u>សុភាព</u> = ស្លូតបូត (ក្មេងនេះសុភាព គឺក្មេងមិនកាចឫកពាស្លូត) ។ <u>ដទៃ</u> = គឺអ្នកទាំងពួង ។ <u>ដំរាប់</u> = ធ្វើតាម ធ្វើឲ្យដូច ធ្វើត្រាប់ ។

ពាក្យសួរ: សួនជាក្មេងដូចម្តេច? ។ វារៀនដូចម្តេច? ។ ហេតុអ្វីបានជាគេស្រឡាញ់វា? ។ អ្នកចង់ធ្វើដូចវាឬទេ? ។

អក្សរផ្ចង់: ត្រូវខំស្វាហាប់រៀន ហើយប្រព្រឹត្ត កិរិយាសុភាព ។

## ៦ – កូនសិស្សអាក្រក់

សួនមកសាលារៀនរាល់ថ្ងៃ ប៉ុន្តែវាគិតតែលេងជាងរៀន វាខ្ជិលណាស់ វាមិនប្រយ័ត្នក្នុងការរៀនសូត្រទេ កិរិយាវា



មិនសុភាពទេ មិនចេះគួរសម ហើយមិនស្អាតផង ។ ហេតុដូច្នេះ គ្រូស្ដីបន្ទោសវាជារឿយៗ ។ មួយទៀត សួនចិត្តអាក្រក់កាចព្រហើន ចិត្តស្រាលហើយឆាប់ខឹងផង ។ យើងរាល់គ្នាដែលនៅរៀនជាមួយមិនចូលចិត្តនឹងវាទេ ។

ពាក្យពន្យល់ៈ និកតែលេង = គឺនឹកតែចង់លេង នឹកតែល្បែង ។

ស្តីបន្ទោស = គឺនិយាយគំហែង ថានឹងធ្វើទោស ។

អក្សរផ្ចង់ៈ មនុស្សខ្ជិលចាំតែរងទុក្ខវេទនា ។

## ៧._ កិច្ចដែលត្រូវប្រណិប័តន៍គ្រូ

នៅសាលាខ្ញុំស្តាប់គ្រូនិយាយ ខ្ញុំធ្វើការដែលលោកបង្គាប់ឲ្យខ្ញុំធ្វើ ខ្ញុំស្តាប់បង្គាប់លោក ខ្ញុំសំពះគ្រូវេលាដែលខ្ញុំចូលទៅក្នុងកន្លែងរៀន ហើយនឹងវេលាមុនដែលខ្ញុំត្រឡប់មកផ្ទះវិញ ។ ខ្ញុំសំពះគោរពប្រណិប័តន៍លោកទៀត វេលាដែលជួបប្រទះនឹងលោកនៅផ្លូវ ឬនៅទីកន្លែងណាមួយ ។

ខ្ញុំស្រឡាញ់ ហើយកោតខ្លាចគ្រូខ្ញុំ ដូចជាខ្ញុំស្រឡាញ់ហើយកោតខ្លាចឪពុកម្តាយខ្ញុំដែរ ។

ពាក្យពន្យល់ : គោរពប្រណិប័តន៍ = គឺសំពះដោយគោរពខ្លាច ។ ប្រតិបត្តិ ឬ បដិបត្តិ = គឺធ្វើតាម ។

រៀនពាក្យ : ស្តាប់គ្រូនិយាយ ។ ធ្វើតាមបង្គាប់ ។ ត្រឡប់មកផ្ទះវិញ ។

អក្សរផ្ចង់ : យើងត្រូវស្រឡាញ់ហើយគោរពខ្លាចគ្រូយើង ។

---

## ៨ - ខ្លួនមនុស្ស

ខ្លួនមនុស្សមានបីបំណែក គឺក្បាលមួយ ដងខ្លួនមួយ ហើយនឹងដៃជើង ។ នៅលើក្បាលមានសក់ ហើយនៅខាងមុខ មានមុខ ។ កបន្តក្បាលជាប់នឹងដងខ្លួន ។ ដងខ្លួនមានទ្រូងនៅខាងមុខហើយខាងលើ មានពោះនៅខាងក្រោម មានខ្នងនៅខាងក្រោយ ។ ដៃជើងជាប់ទៅនឹងដងខ្លួន ។

ដៃមួយ ៗ មានដើមដៃ កំភួនដៃ ហើយនិងតួដៃ ។ តួដៃមាន ម្រាមប្រាំ ។ ជើងមួយ ៗ មានភ្លៅ ស្មងជើង ហើយនិងតួជើង ។ ដៃសំរាប់ចាប់កាន់យករបស់ទាំងឡាយ ជើងសំរាប់ដើរ ។ នៅក្នុងខ្លួន មានសាច់ ឈាម សរសៃ ហើយនិងឆ្អឹង ។

មនុស្សមានត្រចៀក ភ្នែក ច្រមុះ ហើយនិងមាត់ ។ ត្រចៀកសំរាប់ឮ ភ្នែកសំរាប់មើលឃើញ ច្រមុះសំរាប់ហិតក្លិន មាត់សំរាប់ភ្លក់រសជាតិអាហារ ។

---

ពាក្យពន្យល់ : ចំណែក = របស់ដែលគេចែកជាច្រើនភាគ ១ ភាគ ៗ ហៅថា ១ចំណែក ។ ភ្លក់ = គឺស៊ីបន្តិចឲ្យគ្រាន់តែដឹងរសជាតិ ។

ពាក្យសួរ : ខ្លួនមនុស្សមានប៉ុន្មានចំណែក? ដងខ្លួនខាងមុខហៅអ្វី? ។

អក្សរផ្ចង់ : ត្រចៀកសំរាប់ឮ ភ្នែកសំរាប់ឃើញ ។

# ៩.– ត្រូវសំអាតខ្លួនជាដរាប

ការសំអាតខ្លួន នាំឲ្យបានសេចក្ដីសុខសប្បាយ ត្រូវងូតទឹក ដុសលាងខ្លួនប្រាណឲ្យស្អាតជាដរាប ។ ត្រូវងូតទឹកស្អាតហើយដុសសាប៊ូផង ។ សេចក្ដីស្មោកគ្រោក បណ្ដាលឲ្យមានរោគ ។ ត្រូវចៀសវាងកុំប្រើសម្លៀកបំពាក់ក្រខ្វក់ ហើយកុំបរិភោគបំណាំអាហារណាដែលមិនស្អាត ។ ដៃត្រូវលាងរឿយ ៗ មុនបរិភោគបាយ ក្រោយបរិភោគ និងក្រោយចាប់កាន់អ៊ីវ៉ាន់ណាដែលមិនស្អាត ។ កុំយកម្រាមដៃប្រឡាក់ប្រឡូសទៅជូតទៅពាល់ភ្នែក វានឹងបណ្ដាលឲ្យឈឺភ្នែក ហើយឲ្យទៅជាខ្វាក់ផងក៏មានដែរ ។

---

<u>ពាក្យពន្យល់</u> : <u>ប្រាណ</u> = គឺខ្លួន ។ <u>បណ្ដាលឲ្យ</u> = គឺនាំឲ្យ ។ <u>រោគ</u> = គឺជម្ងឺ ។ <u>បរិភោគ</u> = គឺស៊ី ។

ពាក្យសួរ ៖ យើងត្រូវផឹកទឹកបែបយ៉ាងដូចម្ដេច ដើម្បីឲ្យបានស្អាតខ្លួន? ។ ពីព្រោះអ្វី បានជាយើងត្រូវលាងដៃ មុនបរិភោគបាយ? ។ ពីព្រោះអ្វី បានជាយើងមិនត្រូវយកម្រាមដៃទៅជូតភ្នែក? ។

អក្សរផ្ចង់ ៖ យើងត្រូវផឹកតែទឹកស្អាតហើយដុសសាប៊ូផង ។



## ១០- ត្រូវប្រយ័ត្ននឹងរោគ

ត្រូវកុំឲ្យមនុស្សកើតកមរមាស់នៅជិត ពីព្រោះរោគនេះជាជម្ងឺឆ្លង ។ មានជម្ងឺឆ្លងច្រើនទៀត គឺជម្ងឺអាសន្នរោគ-អុត-មួល-របេង ។ គ្រុនចាញ់ឆ្លងតាមមូសខាំ ។ កាលណាមានជម្ងឺឈឺនៅស្រាល ត្រូវប្រាប់ទៅឲ្យគ្រូពេទ្យមើល ត្រូវចាក់ថ្នាំ ផឹកថ្នាំ លេបថ្នាំ កុំទុកយូរ ខ្លាចក្រែងវាទៅជាធ្ងន់ ។ បើកាលណា មានរបួសកាំបិតមុត ឬឈើមុត ត្រូវលាងនឹងទឹកស្អាត

លាបថ្នាំហើយរុំនឹងសំឡីឲ្យជិត ។ រោគក្អកផ្ដាសាយ ឈឺទ្រូង កើតមកអំពីត្រជាក់សើម ។ បើកាលណាមានជម្ងឺឈឺ ត្រូវមើលខ្លួនឲ្យជា ។

នៅវេលាស្រុកកើតជម្ងឺ ត្រូវប្រយ័ត្នកុំបរិភោគចំណីផ្ដេសផ្ដាស ត្រូវផឹកតែទឹកដាំពុះ ត្រូវបោសសំអាតផ្ទះសម្បែង សំរាមត្រូវចាក់ចោលឲ្យឆ្ងាយពីផ្ទះ ហើយដុតភ្លើង ត្រូវចាក់ថ្នាំ ត្រូវដោះអុត ។ ហាមផ្ដាច់មិនឲ្យបរិភោគបន្លែស្រស់ ហើយនឹងផ្លែឈើខ្ចី ។



---

ពាក្យពន្យល់ ៖ ជម្ងឺកាសន្ទះរោគ = គឺជម្ងឺចាប់ឈឺម្ដង ១ ច្រើននាក់ ហើយស្លាប់ឆាប់ណាស់ ដូចជាជម្ងឺប៉ះគ្នុត ជម្ងឺប៉េស្ដ ។ រាតត្បាត = គឺជម្ងឺគ្នុតរីករាលហើយមានគ្នាក់ឈាមផង ។ បោស = គឺដំបៅដោយកាំបិតមុតឬឈើមុត ។

ពាក្យសួរ: *មានជម្ងឺអ្វីខ្លះ ដែលជាជម្ងឺឆ្លង? ។ កាលណាយើងឈឺ យើងត្រូវធ្វើដូចម្ដេច? វេលាស្រុកកើតជម្ងឺ យើងត្រូវប្រយ័ត្នដូចម្ដេចខ្លះ? ។*

អក្សរផ្ចង់– *យើងមិនត្រូវបរិភោគផ្លែឈើខ្ចីទេ។*

## ១១.– ក្រុមញាតិចៅកេត

ក្នុងគ្រួចៅកេត មានមនុស្សច្រើននាក់គឺ ឪពុកម្ដាយវា បងប្រុសវាពីរនាក់ ប្អូនស្រីវាម្នាក់ ហើយនឹងវា ។ ម្ដាយវាក្មេងជាងឪពុកវាបីឆ្នាំ ។ ប្អូនស្រីវាអាយុតិចជាងវាពីរឆ្នាំ ។ ចៅកេតមានបងប្អូនច្រើនទៀត កូនរបស់មានឹងម្ដាយមីងវា ត្រូវជាបងប្អូនជីដូនមួយវា ។



បងប្អូនជីដូនមួយប្រុសវាម្នាក់នៅលីវ គាត់ទើបនឹងដណ្ដឹងប្រពន្ធបានកូនក្រមុំម្នាក់ ហើយជិតរៀបការហើយ ។ ជីតាខាងឪពុកចៅកេតស្លាប់តាំងពីយូរហើយ ជីដូនវានៅមានអាយ

ចាស់ជរាណាស់ហើយ ។ ឯជីដូនជីតាខាងម្ដាយវិញ នៅរស់ទាំងអស់ ជួនណា គាត់នៅជាមួយនឹងកូនប្រុសស្រីគាត់ ជួនកាល គាត់នៅជាមួយនឹងចៅប្រុសគាត់ម្នាក់ ដែលទើបនឹងមានប្រពន្ធ ។

ពាក្យពន្យល់ – ក្រុម = គឺពួក ។ ញាតិ = គឺបងប្អូនជិតឆ្ងាយគ្រប់ទាំងអស់ គេតែងហៅថា ញាតិសន្ដាន ផៅសន្ដាន ដែរ ។ គ្រួ = គឺមួយក្រុមមានតែឪពុកម្ដាយ ហើយនិងកូន ។ លីវ = គឺមិនទាន់មានប្រពន្ធបើជាប្រុស ឬមិនទាន់មានប្ដីបើជាស្រី ។ មេម៉ាយ = គឺស្រីប្ដីស្លាប់ឬលែងគ្នា ។ ជរា = (ជាពាក្យស្ទួនលើពាក្យ ចាស់) គឺបានសេចក្ដីចាស់ ។ កូនប្រសា = គឺកូនគេឯទៀតដែលយកកូនខ្លួនធ្វើជាប្រពន្ធ ឬធ្វើជាប្ដី ។

អក្សរផ្ចង់ – ខ្ញុំស្រឡាញ់ ហើយគោរពខ្លាច ឪពុកម្ដាយខ្ញុំណាស់ ។

## ១៦. – បងប្អូនចៅកេត

ឪពុកចៅកេតត្រូវចិញ្ចឹមក្មួយស្រីកំព្រាម្នាក់ទៀតផង ក្មួយ
នេះមិនទាន់មានប្ដីទេ ។ ប្អូនប្រុសម្ដាយចៅកេតម្នាក់ក៏មិនទាន់
មានប្រពន្ធដែរ គាត់នៅកម្លោះហើយគាត់នៅផ្ទះមួយម្នាក់ឯង ។
បងថ្លៃឪពុកចៅកេតម្នាក់ ប្រពន្ធស្លាប់បានពីរឆ្នាំហើយ គាត់
ពោះម៉ាយហើយនៅជាមួយនឹងទុំកំដរបាវព្រាវ ហើយនឹងម្ដាយ
ក្មេកគាត់ ។ ប្អូនថ្លៃឪពុកចៅកេតម្នាក់ទើបនឹងលែងប្រពន្ធក៏
នៅពោះម៉ាយដែរ ។

ចៅកេតស្រឡាញ់កោតខ្លាចស្ដាប់បង្គាប់ ហើយដឹងគុណ
ជីដូនជីតាវាណាស់ ពីព្រោះវាដឹងថាគាត់បង្កើតហើយចិញ្ចឹមបី-
បាច់រក្សាឪពុកម្ដាយវាៗហៅ យាយ តា ។ បងប្រុសបង្កើតម្នាក់
របស់ជីតាចៅកេតៗ មិនស្គាល់ទេ ពីព្រោះគាត់អនិច្ចកម្មមុនវា
កើត ។ មនុស្សទាំងអស់ក្នុងវង្សត្រកូលចៅកេតរាប់អានគ្នា
ហើយជួយគ្នាណាស់ ។

ពាក្យពន្យល់ ៖ កំព្រា = គឺឪពុកឬម្ដាយស្លាប់ចោលឬស្លាប់ទាំងពីរនាក់ ។ បងថ្លៃ = គឺបងខាងប្រពន្ធឬខាងប្ដី ។ ពោះម៉ាយ = គឺប្រុសប្រពន្ធស្លាប់ឬលែងគ្នា ។ ខ្ញុំកំដរបាវព្រាវ = (ជាពាក្យសួរលើគ្នា, គឺអ្នកបំរើ ។ ម្ដាយក្មេក = គឺម្ដាយខាងប្រពន្ធ ឬខាងប្ដី ។ ចំបាច់រក្សា (ជាពាក្យសួរលើគ្នា) = គឺថែរក្សា ។ បងប្អូនបង្កើត = គឺបងកើតមកអំពីឪពុកម្ដាយជាមួយគ្នា ។ អនិច្ចកម្ម (ជាពាក្យខ្ពស់) = គឺជាស្លាប់ ។ វង្សត្រកូល = គឺក្រុមញាតិពូជជាមួយគ្នា ។

អក្សរផ្ចង់ ៖ មនុស្សទាំងអស់ក្នុងវង្សត្រកូល ចៅកើតស្រឡាញ់រាប់អានគ្នាណាស់ ។



# ១៣.— ស្រឡាញ់បងប្អូន

កាលពីដើម មានខ្មែរម្នាក់ឈ្មោះប្រាក់ ជំពាក់បំណុលគេម្ភៃណែន រកសងគេមិនបាន ទៅលក់ខ្លួនទៅជាខ្ញុំព្រះអង្គម្ចាស់មួយព្រះអង្គ ។ ប្រាក់ជាមនុស្សឧស្សាហ៍ហើយប្រសប់ផង ខំឆ្លៀតធ្វើការបានតែបីឆ្នាំ រកបានប្រាក់ម្ភៃណែនដែលជំពាក់គេនោះ ។ មុនដំបូង ប្រាក់គិតនឹងលោះខ្លួនគាត់ឲ្យរួចពីខ្ញុំគេ ប៉ុន្តែដល់ដឹងថា ប្អូននៅជាខ្ញុំគេដូចគាត់ដែរ គាត់ក៏យកប្រាក់ទាំងអស់ទៅលោះប្អូនគាត់ ។

ដល់ព្រះអង្គម្ចាស់ ទ្រង់បានជ្រាបដូច្នោះ ទ្រង់មានព្រះបន្ទូលថា ឯងចិត្តល្អនឹងប្អូនឯង អញឲ្យឯងរួចជាអ្នកជា ទៅរកប្អូនឯងចុះ ហើយនៅជាមួយគ្នាឲ្យសុខសប្បាយ ។

បងប្អូនប្រុសក្តី ស្រីក្តីត្រូវស្រឡាញ់គ្នា[illegible] ។

ពាក្យពន្យល់ – បំណុល = (មកពីពាក្យថា បុល) ប្រែថា ជំពាក់គេ ។ ណែន = គឺប្រាក់ដែលស្រុកខ្មែរយើងតាំងពីដើម គេធ្វើកង់ប្រហែលស្លឹកជ្រៃ ទម្ងន់ស្មើនឹងសាច់ប្រាក់ ១៦ រៀល ។ ប្រសប់ = គឺប្រះឆ្លាតធ្វើការ ។ លោះខ្លួន = គឺជូនប្រាក់គេឲ្យបានរួចខ្លួនពីខ្ញុំគេ ។ ព្រះអង្គម្ចាស់ = គឺកូនស្ដេច ។ ព្រះបន្ទូល = គឺនិយាយ ។ ជាអ្នកជា = គឺរួចពីខ្ញុំគេ ។ ទ្រង់ = ពាក្យសំរាប់និយាយនឹងស្ដេចដូចជាថា លោក ។

ពាក្យសួរ. ហេតុដូចម្ដេចបានជាប្រាក់លក់ខ្លួនធ្វើជាខ្ញុំគេ? ។ ប្រាក់ជាមនុស្សដូចម្ដេច? ។ ប្រាក់គេ ប្រាក់បានប៉ុន្មាន? ។ ដល់បានប្រាក់ហើយ ប្រាក់គិតដូចម្ដេច? ។ ព្រះអង្គម្ចាស់មានព្រះបន្ទូលដូចម្ដេច? ។

អក្សរផ្ចង់: បងប្អូនប្រុសក្ដី ស្រីក្ដីត្រូវស្រ-
ឡាញ់គ្នាជាដរាប ។

# ១៤. - ចំណីអាហារខ្មែរ

បាយឆ្អិនហើយ ម្ដាយហើយនឹងបងស្រីចៅម៉ូងដោះដួស ដាក់ចានចំរៀបក្នុងថាសដាក់លើកន្ទេលមួយ ។ នៅជិតខាងនោះ មានទឹកពីរផ្តិល ។ ឪពុកម្ដាយ បងប្អូនប្រុសស្រី ហើយនឹងចៅម៉ូងអង្គុយជុំវិញខ្ទះក្តៅៗនោះ ។ ម្ហូបនោះមានសម្ល វ្លែបង់ម្ជូរអម្ពិល - ត្រីងៀតដុត - ត្រីឆ្អើរ - អន្លក់ស្រស់ - ទឹកគ្រឿងមួយចាន ហើយនឹងសាច់ជ្រូកសាបអាំងបន្តិច ។

ក្រនោះមិនសូវប្រួលចិត្តបរិភោគសាច់នោះទេ ។ ប្អូនស្រីចៅម៉ូងមិនចេះស៊ីគ្រឿងប៉េរេ គេធ្វើទឹកជ្រលក់មួយចាន ដែលមានតែទឹកអំបិល ហើយនឹងម្រេចខ្ញីសំរាប់ឲ្យវា ម្ទេសក៏គេមិនដាក់ ប្រេងក៏គេមិនដាក់ ។

*ពាក្យពន្យល់ - ថាស = គឺប្រដាប់រាបមូល បំប៉ែតធ្វើពីស្ពាន់ សំរាប់ដាក់ចានម្ហូបស៊ី ។ បង់ = គឺដាក់គ្រឿងទៅក្នុងសម្ល ។ អន្លក់ = គឺបន្លែដែលគេស៊ីជ្រលក់ក្នុងទឹកគ្រឿង ។ ទឹកគ្រឿង = គឺទឹកជ្រលក់ គេដាក់គ្រឿងផ្សេងៗ ។ បរិភោគ = គឺស៊ី ។*

# ១៥. — ចិនស៊ីបាយ

ម្ហូបចិនមានច្រើនមុខ គឺសាច់ជ្រូកកាត់ជាដុំតូចៗ ចៀននឹងខ្លាញ់ ហើយដំដំខ្ទឹម សាច់ជ្រូកខ្វៃ មាន់ ឬទាស្ងោរ ពងទាប្រៃ សាច់ក្រក ។ ចិនស៊ីបាយនឹងចង្កឹះ ។ កំពុងស៊ីបាយ ចិនផឹកស្រាផង ។ លុះបរិភោគរួចហើយ គេផឹកទឹកតែ ។

អាហារសំខាន់របស់បារាំង គឺនំប៉័ង ។ បារាំងបរិភោគប្រើចានទាប ស្លាបព្រា សម កាំបិតសំរាប់កាត់សាច់ កន្សែងជូតដៃ ហើយផឹកស្រាទំពាំងបាយជូរដាក់ក្នុងកែវ ។ កាលណាបរិភោគរួចហើយ គេអាស្រ័យបង្អែមមានផ្លែឈើឬនំផ្សេងៗ ។



ពាក្យពន្យល់ — ចៀន = ដំបំអិននឹងខ្លាញ់ ។ ជ្រូកខ្វៃ = គឺជ្រូកគេដុតឲ្យក្រៀមមានដាក់គ្រឿងផង ។ សំខាន់ = គឺធំបំផុត ។

អក្សរផ្ចង់: អាហារសំខាន់របស់ខ្មែរ គឺបាយ ។

# ១៦.– សំលៀកបំពាក់

សំលៀកបំពាក់ដែលយើងស្លៀកពាក់ ខ្លះធ្វើនឹងអម្បោះ ខ្លះធ្វើនឹងសូត្រឬរោម ។

ខ្មែរប្រុសស្លៀកសំពត់ចងក្បិន ហើយពាក់អាវកត្រង់ ។ ស្រីខ្មែរក៏ស្លៀកសំពត់ដែរ ប៉ុន្តែពាក់អាវបំពង់វែង ហើយបង់ក្រមាផង ។ ចាម ជ្វា ក្លិង្គ ស្លៀកសារុង ៗនោះមានច្រើនព័ណ៌ ។ យួន ចិន បារាំង ស្លៀកខោ ។ ខោយួន-ចិនជើងធំទូលាយជាងខោបារាំង ។ យួនទាំងប្រុសទាំងស្រីពាក់អាវវែងដាក់ឡេវគោម្ពាក់ ហើយប្រុសមានឈ្នួតជូតក្បាលផង ឯស្រីជូតក្បាលនឹងកន្សែង ឬបាំងឆត្រ ឬពាក់មួកជួនធ្វើនឹងស្លឹកចាក ។ ចិនកូនឈ្នួល (ក្លី) ស្លៀកខោខ្មៅពាក់កណ្ដាលភ្លៅ ហើយលែងខ្នងទទេ ។ ខោបារាំងជើងតូចបង្អៀត ហើយមានឡេវដាក់ពីខាងមុខ ហើយនិងហោប៉ៅសងខាងផង ។

ពាក្យពន្យល់ .– ព្រែ = គឺសំពត់ធ្វើពីសូត្រសរសៃឆ្មារល្អ ។ អាវបំពង់វែង = គឺអាវកាត់មូល ដូចបំពង់ធ្លាក់ដល់ជង្គង់មានដៃវែង ហើយចង្អៀត ។ ឈ្នួត = គឺសំពត់មួយផ្ទាំងតូចដែលគេយកមករុំពីលើក្បាល ។ ស្ទឹកបាក = ស្ទឹកដូចស្ទឹកគោត ប៉ុន្តែតូចជាងស្ទឹកគោត ។

ពាក្យសួរ : គេយកអ្វីខ្លះមកធ្វើសំលៀកបំពាក់ ? ។ គេធ្វើដូចម្តេច ? ។ ខ្មែរប្រុសស្លៀកដូចម្តេច ? ។ ចុះខ្មែរស្រី ? ។ ចាម ជ្វា កុលា ស្លៀកអ្វី ? ។

អក្សរខ្ចង់ . យើងត្រូវសំអាតសំលៀកបំពាក់យើងជាដរាប ។

---

## ១៧.– សំលៀកបំពាក់ (ត)

នៅស្រុកក្តៅ គេច្រើនប្រើសំលៀកបំពាក់ស ហើយស្តើង ។ ឯស្រុករងា គេប្រើសំលៀកបំពាក់ខ្មៅ ហើយក្រាស់ ហៅថា សាក្លាត ធ្វើនឹងរោមសត្វចៀម ។

នៅស្រុកខ្មែរយើងសព្វថ្ងៃនេះ ខ្មែរប្រុសមានអ្នករាជការផង.ដើម ស្លៀកខោ ពាក់អាវបើកក ពាក់មួក ៗ ស្រោមជើង ហើយនឹងស្បែកជើង ដូចជាបារាំងដែរ ហើយមានស្រីជាច្រើន នៅទីក្រុងពាក់អាវឡី មានអាវទ្រនាប់ផង ៗ ថ្ងៃបុណ្យ ស្រីខ្មែរពាក់អាវប៉ាក់ផរ ហើយតែងខ្លួននឹងគ្រឿងមាស គឺខ្សែក កន្លាស់ក ខ្សែខ្លួន ខ្សែដៃ បិញ្ជៀន ទំហូ ការ រយ៉ាដាំ ត្បូងពេជ្រ ឬត្បូងថ្មផ្សេងៗតាមមាន តាមក្រ ។ ក្មេងស្រីតូចៗ ពាក់កងជើង ស្រីក្រមុំកូនកាត់ចិន សៀតស្នៀតសក់នៅផ្នួងសក់ផង ។.

---

ពាក្យពន្យល់ ៖ ប៉ាក់ផរ = គឺដាក់ផរផនឲ្យល្អមើល ។ តែងខ្លួន = គឺធ្វើខ្លួនឲ្យល្អ ។ ត្បូងពេជ្រ = គឺត្បូងថ្លៃបំផុតក្នុងលោក ។ ។ កូនកាត់ = គឺកូនកើតមកអំពីឪពុកម្ដាយសាសន៍ខុសគ្នា គឺម្ដាយខ្មែរឪពុកចិន ។

ពាក្យសួរ: នៅស្រុកគេ គេប្រើសំលៀកបំពាក់ដូចម្ដេច? ។ ចុះនៅស្រុកយើង? ។ ខ្មែរអ្នកកសិការស្លៀកពាក់ដូចម្ដេច? ។ វេលាថ្ងៃបុណ្យ ស្រីខ្មែរស្លៀកពាក់ដូចម្ដេច? ។

អក្សរផ្ចង់: ថ្ងៃបុណ្យ ខ្ញុំតែងខ្លួននឹងសំលៀកបំពាក់ថ្មី ។

---

## ១៨.– អំពីទីលំនៅ - ផ្ទះខ្មែរ

ខ្មែរនៅផ្ទះសង់លើបង្គោលខ្ពស់ពីដី ធ្វើនឹងឈើ ឬនឹងឫស្សី ប្រក់ស្លឹកត្នោត ឬស្បូវ ។ តាមធម្មតា សសរធ្វើនឹងឈើជាប់ រនាបធ្វើនឹងបន្ទះឫស្សីត្បាញ ជញ្ជាំងធ្វើនឹងស្លឹកឬនឹងឫស្សីដែរ។ តាមទំនៀមទំលាប់ខ្មែរមិនធ្វើទ្វារបង្អួចច្រើនទេ មានតែទ្វារចូលមួយហើយនឹងបង្អួចតូចៗពីរបី ។ គេចូលផ្ទះឡើងតាមជណ្ដើរ។ នៅក្នុងផ្ទះអ្នកក្រ តុក៏គ្មាន កៅអីក៏គ្មាន ជើងម៉ាក៏គ្មាន ទូក៏គ្មាន

ទូបានក៏គ្មាន ហើយគ្រែក៏គ្មានដែរ ។ គេដេកលើកន្ទេល ក្រាលលើរនាប ។ បន្ទប់ទទួលភ្ញៀវនៅល្វែងក្រៅធ្វើជាបន្ទប់ស៊ីបាយផង ។ ប៉ុន្តែអ្នកមានគ្រាន់បើ ហើយនិងតាម៉ឺននឹងមានផ្ទះឈើ ក្រាលក្ដារ ប្រក់ក្បឿង ។ អ្នកមានធំនឹងមានផ្ទះថ្មពីរជាន់ ហើយមានពិតានផង ។



ពាក្យពន្យល់: ចន្ទល់= គឺឈើបង្គោលសម្រាប់ទល់ពីក្រោម ។ ស្បូវ= គឺស្មៅមួយយ៉ាង ស្លឹកតូចវែងសម្រាប់ប្រក់ផ្ទះ ។ ភ្ញៀវ= គឺមនុស្សមកសួរ ឬមកលេងផ្ទះ ។ ផ្ទះពីរជាន់ = ផ្ទះមានថ្នាក់លើថ្នាក់ក្រោម ។ ពិតាន = គឺធ្វើពីក្ដារ ឬពីវាយអបិទពីក្រោមដំបូលកុំឲ្យក្ដៅ ។

ពាក្យសួរ: ផ្ទះខ្មែរគេសង់បែបដូចម្ដេច ? ។ គេច្រើនតែប្រក់នឹងអ្វី ? ។ គេចូលផ្ទះឡើងតាមអ្វី ? ។ ផ្ទះអ្នកមានធំ គេច្រើនតែធ្វើដូចម្ដេច ? ។

អក្សរផ្ចង់: យើងត្រូវបោសសំអាតផ្ទះរាល់ថ្ងៃ ។

# ១៩ - ភូមិខ្ញុំ

ភូមិខ្ញុំនៅជិតក្រុង មានផ្លូវថ្នល់មួយទៅពីភ្នំពេញកាត់ភូមិនោះ ។ ផ្លូវនោះធំទូលាយក្រាលថ្ម ហើយចាក់កៅស៊ូផង ។ បើទៅភូមិនោះ គេត្រូវចុះពីផ្លូវធំ ហើយដើរតាមផ្លូវជើងមួយទៅ ។ នៅរដូវវស្សា ផ្លូវជើងនេះមានទឹកដក់ជាថ្លុកជុំៗ មានភក់ ហើយមានក្រហែងក្រហូងជាច្រើនអន្លើ ប៉ុន្តែក្នុងរដូវប្រាំង រទេះគោបរទៅបានក្នុងមួយថ្ងៃដល់ភូមិ ។ នៅចិញ្ចើមសងខាងផ្លូវថ្នល់ ត្រង់កន្លែងផ្លូវបែកចុះទៅភូមិ មានផ្ទះតៀមចិនលក់ទំនិញពីរបី ។

ផ្ទះទាំងអស់នៅភូមិនោះ សុទ្ធតែសង់លើបង្គោលខ្ពស់ពីដី ហើយប្រក់ស្លឹក មានតែផ្ទះមេឃុំមួយប្រក់ក្បឿង ហើយល្អជាងគេ ។ ផ្ទះទាំងនោះមានរបងបង្គោលឫស្សីព័ទ្ធជុំវិញ នៅក្នុងរបងនោះ មានដើមចេក ដូង ស្លា ខ្នុរ ទៀប ត្របែក ល្មុត មៀន ទទឹម ។ ផ្ទះខ្លះមានក្រោលគោធ្វើនៅកៀនក្បែររបង ទ្រុងជ្រូក ហើយនឹងទ្រុងមាន់ធ្វើនៅក្រោមម្លប់ដើមស្វាយ ។

នៅចុងម្ខាងឆ្ងាយបន្តិច ហើយជិតសាលារៀន មានផ្សារមួយ ដំបូលប្រក់ក្បឿង សសរឈើ បំពេ ឥតជញ្ជាំង គឺនៅផ្សារ នោះហើយ ដែលអ្នកស្រុកតែងតែនាំទំនិញទៅដាក់លក់ ហើយ នឹងទិញជូររាល់ព្រឹក ។

---

## ៦១._ ផ្សារនៅភូមិខ្ញុំ

ផ្សារនោះនៅកណ្ដាលភូមិ សង់នៅជិតមាត់ផ្លូវទេះឡាន។ សសរធ្វើនឹងឥដ្ឋបាក់បាយអ ដំបូលប្រក់ក្បឿង ហើយបំពាឥត ជញ្ជាំង ទំហំធំល្មម បណ្ដោយ



ប្រវែងប្រហែល ២០ម៉ែត្រ ទទឹង ប្រហែល ១៥ ម៉ែត្រ ។ ក្នុងផ្សារ មានចែកជាប្រើនល្វែង ។ ក្នុង ល្វែងមួយ មានចិនលក់សាច់ជ្រូក ហើយនឹងសាច់គោ ដាក់តុ ដំរៀបជាជួរ ។ នៅល្វែងមួយទៀត មានស្រីអ្នកលក់ត្រីអង្គុយ

ចំហោង ដាក់កញ្ចើត្រីពីខាងមុខ មានត្រីរស់ • (ត្រីស្រស់) ត្រីងាប់ ត្រីងៀត ត្រីឆ្អើរ អន្លង់ ក្តាមសមុទ្រ បង្កង ។ កន្លែងដាក់សាច់ ហើយនឹងត្រីនេះ គេបោសលាងរាល់ថ្ងៃ ប៉ុន្តែនៅតែធុំក្លិនពុំសូវស្រួល ។ ល្វែងបន្ទាប់ទៀត មានអ្នកលក់ចំណី ដំរៀបដំរៀងគ្នា រួចទើបដល់អ្នកលក់មាន់ទា ផ្លែឈើហើយនឹងបន្លែគ្រប់មុខគេគរទំនិញលក់លើរាន ។ នៅក្នុងនោះមានពួកអ្នកលក់ថ្នាំកែរោងដំរៀបថ្នាំសំបកឈើ ហើយនឹងឫសឈើចងជាបាច់តូចៗដាក់លើកន្ទេលក្រាលនៅដី ។

រាល់ព្រឹក នៅទីផ្សារមានមនុស្សដ៏ច្រើន ដើរទៅដើរមកប៉ះគ្នាបង្កៀតពិបាកដើរណាស់ ។ អ្នកទិញ ហើយនឹងអ្នកលក់ជជែកគ្នាអំពីថ្លៃទំនិញឮសូរខ្ទរហ៊ឹង ។

# ៦១. _ ការអ្នកធ្វើស្រែ

អ្នកស្រែមានការធ្វើគ្រប់រដូវ គ្រប់ពេលវេលា តាំងពីដើមឆ្នាំ រហូតដល់ចុងឆ្នាំ ។ កាលណាចូលក្នុងរដូវវស្សាហើយ មុនដំបូងគេរៀបចំប្រដាប់ប្រដាសំរាប់ធ្វើស្រែ គឺបបនង្គ័ល រនាស់ ហើយកាលណាភ្លៀងធ្លាក់ច្រើនហើយ គេភ្ជួររាស់ថ្នាល រួចគេយកស្រូវពូជដែលគេត្រាំទឹក ហើយដែលមានប៉ិចពន្លកទៅសាបក្នុងថ្នាលនោះ ។



ខែភ្ជួរស្រែនឹងនង្គ័លទឹមគោ ឬក្របី ។ លុះដល់សំណាបដុះបានកំពស់ល្មមហើយ គេដកយកទៅស្ទូងក្នុងស្រែធំ ។ ការដកស្ទូងនេះច្រើនតែស្រីធ្វើ ដល់ស្ទូងរួចហើយគេត្រូវថែរក្សាទៀតទាល់តែស្រូវចេញ គឺការពារ បោចស្មៅ ដាក់ទឹក ហើយប្រយ័ត្នកុំឲ្យសត្វស៊ី ។ល។

ពាក្យពន្យល់ ៖ រដូវវស្សា = គឺរដូវភ្លៀង ។ ថ្នាល = គឺស្រែតូចៗ សំរាប់សាបស្រូវ ។ សំណាប = គឺស្រូវទើបនឹងដុះនៅក្នុងថ្នាល ។ សន្ទូង = គឺស្រូវដែលគេស្ទូងនៅក្នុងស្រែ ។ ស្រូវពេញ = គឺស្រូវគាំងមានផ្លែ ។

ពាក្យសួរ ៖ កាលណាចូលក្នុងរដូវវស្សាហើយ អ្នកស្រែត្រូវរៀបចំអ្វី? ។ កាលណាភ្លៀងធ្លាក់ច្រើនហើយ អ្នកស្រែត្រូវធ្វើអ្វី? ។

អក្សរផ្ចង់ ៖ ក្នុងរដូវវស្សា រាល់ពេលមានមនុស្សធ្វើការក្នុងស្រែ ។



## ៦២. - ការអ្នកធ្វើស្រែ (ត)

បើកាលណារាំងភ្លៀងហើយ គ្មានទឹកក្នុងស្រែ គេបាចទឹកពីប្លុក-ត្រពាំង ឬពីប្រឡាយទឹកជិតខាងបញ្ចូលស្រែ គេបាចទឹកនឹងស្នាច ជួនណា គេជីករង្វះកាត់ភ្លឺស្រែបង្ហូរទឹកដាក់ស្រែ ។

ដល់កាលណាស្រូវទុំហើយ គេច្រូតស្រូវនោះនឹងកណ្ដៀវ គេកាត់ពាក់កណ្ដាលដើម ចងជាកណ្ដាប់ រួចគេជញ្ជូនទៅគរក្នុងលានមួយ រួចហើយគេបោក ឬបែនកណ្ដាប់នោះឲ្យគ្រាប់ស្រូវជ្រុះចេញពីគួរ ។



កណ្ដៀវ

ឯចម្បើងគេគរទុកឲ្យគោ ឬក្របីស៊ីក្នុងរដូវប្រាំង ឬទុកប្រក់ខ្ទម ។

---

ពាក្យពន្យល់ : ស្នាច = គឺប្រដាប់ធ្វើពីឈើលុងកណ្ដាលដូចស្លូក មានដងសម្រាប់កាន់បាចទឹក គេបង្ហូរទឹកទៅស្រែជ្រាងមី ៗ កណ្ដាប់ = គឺបាច់ស្រូវ ៗ លាន = គឺដីដែលគេធ្វើឲ្យរលីងសំរាប់បោកស្រូវ ៗ បោកស្រូវ = គឺយកកណ្ដាប់ទៅបោកនឹងក្ដារបញ្ឈរពងទៅឲ្យជ្រុះគ្រាប់ស្រូវ ៗ បែនស្រូវ = គឺយកកណ្ដាប់ទៅដាក់ឲ្យគោដើរឲ្យជ្រុះគ្រាប់ស្រូវ ៗ

កួរស្រូវ = គឺចង្កោមនៃស្រូវ ។ ចំបើង = គឺដើមស្រូវដែលច្រូតកាត់អស់ហើយ ។ រដូវប្រាំង = គឺរដូវគ្មានភ្លៀងហើយក្ដៅផង ។

ពាក្យសួរៈ បើគ្មានទឹកក្នុងស្រែ គេត្រូវធ្វើដូចម្ដេច? ។ គេបាចទឹកពីឯណាមកដាក់? ។ គេបាចទឹកនឹងអ្វី? ។

អក្សរផ្ចង់– គេច្រូតស្រូវនឹងកណ្ដៀវ ។

## ២៣ – ស្រូវ

ដំណាំធំបំផុតនៅប្រទេសកម្ពុជាគឺស្រូវ គេដាំស្រូវសឹងតែគ្រប់កន្លែង ហើយច្រើនក្នុងខេត្តកំពង់ធំ តាកែវ កំពត ហើយនឹងស្វាយរៀង ។ តាមធម្មតា គេដាំស្រូវបានតែមួយដងក្នុងមួយឆ្នាំ គេធ្វើស្រែនៅរដូវវស្សា គឺរដូវភ្លៀង គេហៅថា ស្រូវវស្សា ប៉ុន្តែនៅតំបន់ខ្លះជិតបឹង ឬព្រែក-ស្ទឹង ដែលទឹករីងមិនដាច់ គេក៏ធ្វើស្រែនៅរដូវប្រាំងដែរ គេហៅថា ស្រែប្រាំង ។ ស្រូវមាន

ច្រើនបែប គឺស្រូវខ្សាយសម្រាប់ដាំបាយបរិភោគ ស្រូវដំណើប សំរាប់ធ្វើនំ ស្រូវស្រាល ស្រូវធ្ងន់ ស្រូវឡើងទឹកដែលគេដាំក្នុង បឹងត្រពាំង ឬនៅទីដីទំនាបដែលទឹកជំនន់លិច វាលូតឡើង តាមទឹក ។

---

<u>ពាក្យពន្យល់</u> : *ប្រទេសកម្ពុជា = គឺស្រុកខ្មែរ ។ តំបន់ = គឺកន្លែង ។ ស្រូវដំណើប = គឺស្រូវបាយទន់ហើយស្អិត ។ ស្រូវស្រាល – គឺស្រូវឆាប់ផ្លែ ។ ស្រូវធ្ងន់ = គឺស្រូវក្រផ្លែ ។*

<u>ពាក្យសួរ</u> : *ដំណាំអ្វីដែលជាធំបំផុត នៅក្នុងស្រុកខ្មែរ? ។ គេដាំស្រូវច្រើន នៅកន្លែងណាខ្លះ? ។ គេធ្វើស្រែ នៅរដូវណា? ។*

<u>អក្សរចុង</u> : *ស្រូវជាដំណាំធំបំផុត នៅស្រុកខ្មែរ ។*



# ៦៤. – អំពីដំណាំ

ក្រៅអំពីស្រូវ អ្នកស្រុកមាត់ទន្លេធំដាំពោត ដំឡូង សណ្តែក សណ្តែកដី កប្បាស ត្រសក់ ល្ង ល្ហុង ម្ទេស ។ អ្នកខ្លះមានដាំល្ហុង-ខ្មែរផងសំរាប់យកប្រេង ហើយនឹងមន ដើម្បីយកស្លឹកវាឲ្យដង្កូវនាងស៊ី ។ ពោត ដំឡូង ហើយនឹងមើមក្តួច គេស៊ីជំនួសបាយបាន នៅវេលាស្រែកអត់បាយ ។

ឯដើមឈើស៊ីផ្លែក៏មានច្រើនណាស់ដែរ គឺបេក ដូង ស្វាខ្នុរ ស្វាយ ល្ហុង ត្របែក ទៀប ម្នាស់ ល្មុត មៀន ទទឹម ក្រូចឆ្មារ ក្រូចពោធិ៍សាត់ ក្រូចថ្លុង ក្រូចឃ្វិច ស្ពឺ ហើយនឹងត្នោត គេដាំច្រើនក្នុងខេត្តខ្លះ នៅស្រែកស្រែ សំរាប់យកទឹកពីផ្កាវា ធ្វើជាស្ករក៏បាន ផឹកក៏បាន ហើយនឹងយកស្លឹកវាសំរាប់ប្រក់ផ្ទះ ។ នៅគ្រប់ផ្ទះខ្មែរ គេដាំម្លូ វាព្រោះខ្មែរស៊ីស្លា ប៉ុន្តែគេមិនសូវឃើញ



មានសួនផ្កាទេ ឡើយ ។ គេឃើញមានតែបំការបន្លែ គេដាំត្រសក់ ឪឡឹក ត្រឡាច ល្ពៅ ស្ពៃ ខ្ទឹម ប៉េងប៉ោះ ត្រប់ ម្ទេស ។

ពាក្យសួរ — *ក្រៅអំពីស្រូវ នៅស្រុកខ្មែរគេដាំដំណាំអ្វីទៀត ? ។ ដំណាំអ្វីខ្លះដែលគេដាំយកផ្លែ ? ។ ដំណាំអ្វីខ្លះដែលគេដាំយកមើម ? ។ ដំណាំអ្វីខ្លះដែលគេដាំយកគ្រាប់ ? ។ ដំណាំអ្វីខ្លះដែលគេដាំយកស្លឹក ? ។ វេលាស្រុកអត់បាយ គេស៊ីអ្វីជំនួសបាយបាន ? ។ ដើមត្នោតយ៉ាងដូចម្ដេច ? ។ ដើមត្នោតមានប្រយោជន៍អ្វីខ្លះ ? ។*

អក្សរផ្ចង់ — *អំពៅ ហើយនឹងត្នោត គេយកទឹកវាធ្វើស្ករ ។*

## ២៥_ សត្វស្រុក

គោ ក្របី សេះ ឆ្កែ ឆ្មា ជ្រូក មាន់ ទា ក្ងាន ចៀម ពពែជាសត្វស្រុក សត្វអស់ទាំងនេះ ខ្លះជួយធ្វើការឲ្យយើង ដូចជាខ្ញុំកឹជរ គេហៅថា សត្វបំរើ ។

ឆ្មាចាប់កណ្ដុរ ។ ឆ្កែចាំផ្ទះការពារនឹងចោរកុំឲ្យចូលលួចទ្រព្យសម្បត្តិ វាព្រុសហើយព្រោះដេញខាំចោរ ។ ជ្រូកយើងយកសាច់វាបរិភោគ ។ មាន់-ទា យើងយកពងវា ហើយនឹងសាច់វាដែរ ។



គោ-ក្របីសំរាប់ភ្ជួរដី ក្របីមានស្នែងវែង ហើយស្រប វាចូលចិត្តដេកត្រាំទឹកណាស់ ហើយពូកែហែលទឹកណាស់ផង វាហែលឆ្លងទន្លេពីត្រើយម្ខាងទៅត្រើយម្ខាង ។ សេះសំរាប់ជិះ ហើយនឹងអូសរទេះ ។ ដំរីកំណើតជាសត្វព្រៃ គេទាក់វាយកមកផ្សាំងបញ្ចឹមធ្វើជាសត្វស្រុក សំរាប់ដឹកនាំរបស់ធ្ងន់ៗ វាមានប្រមោយមួយវែងសំរាប់ធ្វើជាដៃ កន្ទុយវាខ្លី ស្បែកវាក្រាស់ ហើយមានរោមតិច ភ្លុកវាលក់បានថ្លៃណាស់ គេយកភ្លុកវាធ្វើកង ដងប៉ាកកា កន្ទុយបារី ក្រាសសិតសក់ ប្រអប់ៗល។

សត្វទាំងអស់នេះមានប្រយោជន៍នឹងយើង ហេតុដូច្នេះយើងត្រូវឲ្យចំណីវាស៊ី ត្រូវថែរក្សាវា ត្រូវកុំវាយធ្វើបាបវាឲ្យសោះ ។

# ៦៦.– មេទន្លេញ



សង្វាតសរសេរ អស់អញ កុំខ្ជិល ទើបបានជាគាប់ សង្វាតសូត្ររៀន ដោយគ្រប់ប្រញ្ញត្ត កុំធ្វើលេលាប់ ដោយចិត្តមាក់ងាយ ។ អាស្រ័យមេធា ចិញ្ចឹមរក្សា កុំឲ្យអន្តរាយ អាចយកមកធ្វើ នឹងក្រិយាផ្សាយ ហេតុបង់ពណ្ណរាយ ក្នុងលោកិយ ។ (ច្បាប់ព្រម)

ពាក្យពន្យល់: សង្វាត = ខំស្វាហាប់រៀន ។ អស់អញ = គឺស្មោះចំពោះលើខ្លួន ។ លេលាប់ = ធ្វើតាមចិត្ត ធ្វេសប្រហែស ។ ប្រញ្ញត្ត (ប្បញ្ញត្ត) = គឺបញ្ញត្តការដែលគេបានសំរេចហើយ ។ មេធា = ធ្តាយវុធ (ពាក្យបុរាណហៅថាមេធា) ។ ពណ្ណរាយ = គឺល្អរុងរឿង ។

អក្សរផ្ចង់: អាស្រ័យមេធា ចិញ្ចឹមរក្សា កុំឲ្យ អន្តរាយ ។

## ៤៧.– ទំនុកច្រៀង



សារិកាកែវអើយ ស៊ីអីកង ៗ
ស៊ីផ្លែដំបង ប្រចឹកគ្នាលេង ។
ស្លាបវាចាក់ក្បាច់ មាត់វាធ្វើភ្លេង
ប្រចឹកគ្នាលេង លើមែកព្រឹក្សា ។

ពាក្យពន្យល់ៈ *សារិកាកែវ = សត្វស្លាប ចេះត្រាប់ពាក្យមនុស្ស បើគេយកមកចិញ្ចឹម ។ ប្រចឹក = គឺទាំគ្នាលេងនឹងចំពុះ ។ ព្រឹក្សា = គឺដើមឈើ ។*

ពាក្យសួរៈ *អ្នកដែលឃើញសារិកាកែវឬទេ? ។ ឃើញឯណា? ។ វាចេះធ្វើអ្វីខ្លះ? ។ ហេតុអ្វីបានជាគេចាប់វាយកមកចិញ្ចឹម? ។ ចិញ្ចឹមសត្វទុកក្នុងទ្រុងដូច្នេះ ជាការល្អឬទេ? ។ ពីព្រោះអ្វី? ។*

អក្សរផ្ចង់ៈ *ស្លាបវាចាក់ក្បាច់ មាត់វាធ្វើភ្លេង ។*

# ២៨. - ប្រដាប់ដឹកនាំអីវ៉ាន់

ចិនប្រសប់ធ្វើជំនួញណាស់ លក់ដូរពូកែណាស់ ។ ខ្មែរមិនធ្លាប់ធ្វើជំនួញទេ មិនសូវហ៊ានធ្វើទេ ខ្លាចខាត គេចូលចិត្តធ្វើស្រែ ចំការយកផលលក់ឲ្យចិន ។ ការដែលទុកឲ្យចិនធ្វើជំនួញដូច្នេះ ចិនបានចំណេញជាប្រាក់ច្រើនណាស់ ។

ការជំនួញនៅស្រុកខ្មែរ ធ្វើជាមួយនឹងប្រទេសឯទៀតណាមខាងក្នុង តាមផ្លូវជើងទឹកក៏បាន តាមផ្លូវជើងគោកក៏បាន ។ តាមផ្លូវជើងទឹក គេដឹកនាំទំនិញនឹងកប៉ាល់ ឬនឹងទូកប៉ុកចាយ (ទូកថ្វៃ) តាមទន្លេមេគង្គ ទៅដល់ក្រុងព្រៃនគរ រួចមានកប៉ាល់សមុទ្រនាំចេញទៅប្រទេសដទៃទៀត ។

កាលមុន[illegible] ប្រទេសកម្ពុជា គ្មានផ្លូវថ្នល់ទេ គេដើរដំណើរតាមផ្លូវជើង គេជិះរទេះគោ ឬជិះ[illegible] ឬដើរតាមទន្លេ-ស្ទឹង ឬព្រែក ដំណើរយ៉ាងនេះពិបាកណាស់ ហើយ[illegible] ។ សព្វថ្ងៃនេះមានផ្លូវថ្នល់ក្រាលថ្មខ្វាត់ខ្វែង មាន

ស្ពានឆ្លងព្រែក ហើយមានរទេះឡានដឹកនាំទំនិញ នឹងអ្នកដំណើរពីក្រុងមួយទៅក្រុងមួយបានឆាប់រហ័សដូចចិត្ត ហើយមានទាំងផ្លូវរទេះភ្លើងទៀតផង ពីក្រុងភ្នំពេញទៅដល់ព្រំប្រទល់ដែនប្រទេសថៃ ។

## ២៩ _ កូនត្រកូលមួយៗធ្វើការទាំងអស់គ្នា

ឪពុកខ្ញុំ នឹងបងប្រុសខ្ញុំធ្វើការឯស្រែ ម្ដាយខ្ញុំលក់ដូរឯផ្សារ បងស្រីខ្ញុំធ្វើការឯផ្ទះ គាត់បោសសំអាតផ្ទះ រៀបចំទុកដាក់អីវ៉ាន់



ធ្វើម្ហូបចំណី ប៉ះជួសជុលសំលៀកបំពាក់ ។ គេទាំងអស់គ្នាមានមុខការគ្រប់ខ្លួន តែខ្ញុំមួយមិនទាន់ធ្វើការប្រយោជន៍អ្វី ប៉ុន្តែខ្ញុំធ្វើការនឹងរៀនសូត្រនេះដែរ ខ្ញុំខំរៀនឲ្យបានជាមនុស្សចេះដឹងមានប្រយោជន៍ទៅមុខទៀត ។

ពាក្យពន្យល់ : *អីវ៉ាន់ = របស់ផ្សេងៗ ។ ប៉ះ = គឺដេរសំពត់មួយបន្ទះបិទកន្លែងណាដែលសំលៀកបំពាក់រហែក ។*

**ពាក្យសួរ** ៖ ឪពុកអ្នកធ្វើអ្វី ? ។ ម្ដាយអ្នកធ្វើអ្វី ? ។ បងប្រុស ស្រី អ្នកធ្វើអ្វី ? ។ អ្នកធ្វើអ្វី ? ។

**អក្សរផ្ចង់** ៖ រាល់គ្នាមានការធ្វើគ្រប់ខ្លួន ។

## ៣០_ ពេលវេលា

ថ្ងៃនេះ ខ្ញុំមិនទៅណាទេ ខ្ញុំនៅផ្ទះ ។ ស្អែក ខ្ញុំមិនទំនេរទេ ខ្ញុំមិននៅផ្ទះទេ ខ្ញុំទៅសួរបងប្អូន ហើយខានស្អែក ខ្ញុំត្រឡប់មកវិញ ។ ពីម្សិលមិញ ចៅកេត វាសរសេរសំបុត្រផ្ញើទៅឪពុកម្ដាយវា ។ ឈ្មោះអ៊ិតទើបនឹងចូលរៀនពីម្សិលមួយថ្ងៃ (ម្សិលម៉្ងៃ) ។ ឈ្មោះម៉ៅទើបនឹងទៅអំបិញ (អម្បាញ់មិញ) ។ ព្រឹកមិញ ត្រជាក់ស្រួល ឥឡូវនេះក្ដៅ ។ ព្រឹកនេះយើងឈប់



រៀន ។ ពេលព្រឹករាល់ថ្ងៃ យើងត្រូវរៀនពីម៉ោងប្រាំពីរកន្លះដល់ម៉ោងមួយដងភ្លាប់ ហើយពេលរសៀល ពីម៉ោងបីដល់ម៉ោងប្រាំល្ងាច ។ រាល់ព្រឹក ខ្ញុំក្រោកពីដេកពីព្រលឹម ប្រញាប់នឹងទៅសាលារៀន ។ អ្នកផ្ទៀមករៀនឲ្យទាន់ម៉ោង ។ ថ្ងៃត្រង់ឪពុកម្ដាយខ្ញុំពិសាបាយ ខ្ញុំក៏ទទួលទានជាមួយនឹងគាត់ដែរ ។ ម៉ោងប៉ុន្មាន អ្នកចេញពីរៀន ។ ដល់ម៉ោងហើយឬនៅ ។ ដល់ម៉ោងហើយ ។ ហួសម៉ោងហើយ ។ ជិតដល់ម៉ោងហើយ ។ នៅបន្តិចទៀត ។ ម៉ោងប្រាំខ្វះដប់នាទី ។

---

## ៣១._ យប់ អាទិត្យ ខែ ឆ្នាំ

ឯងមកដល់ពីកាលណា (ពីអង្កាល់) ។ ខ្ញុំបាទទើបនឹងមកដល់អំបិញ (អម្បាញ់មិញ) ។ ខ្ញុំទមកដល់យូរបន្តិចហើយ ។ ពីយប់មិញ មានភ្លៀងច្រើន ហើយមានខ្យល់ព្យុះផង ។ តាំងពីព្រលប់ដល់កណ្ដាលអធ្រាត្រ ខ្ញុំរាណាស់ ទទួលទាន

ដំណេកពុំសូវលក់ទេ ផុតកខ្ញុំក៏សំរាន្តមិនបានដែរ ។ ពីខែមុន ខ្ញុំឈឺមួយអាទិត្យ ។ ពីឆ្នាំទៅ មានភ្លៀងតិចណាស់ ។ ឆ្នាំក្រោយ ប្រហែលមានភ្លៀងច្រើន ។ ថ្ងៃណា អ្នកឈប់រៀន ។ ថ្ងៃនេះថ្ងៃអី ។ ថ្ងៃនេះថ្ងៃអាទិត្យ ។ មួយអាទិត្យ មានប្រាំពីរថ្ងៃ គឺ ថ្ងៃអាទិត្យ-ចន្ទ-អង្គារ-ពុធ-ព្រហស្បតិ៍-សុក្រ-សៅរ៍ ។ ក្នុងមួយឆ្នាំ មាន ១២ខែ គឺខែមិគសិរ-បុស្ស-មាឃ-ផល្គុន-ចេត្រ-ពិសាខ-ជេស្ឋ-អាសាធ-ស្រាពណ៍-ភទ្របទ-អស្សុជ-កត្តិក ។ ខ្មែរចែកខែនីមួយ ៗ ជាពីរបំណែក បំណែកខាងដើម គឺខែភ្លឺ ហៅថា ខ្នើត បំណែកខែងងឹត ហៅថា រនោច គេរាប់ថា ១ កើត ២កើត ... រហូតដល់ ១៥ កើត គឺថ្ងៃពេញបូណ៌មី រួច ១ រោច ២ រោច ... រហូតដល់ ១៤ ឬ ១៥ រោច គឺថ្ងៃខែដាច់ ។ ថ្ងៃ ៨ កើត ថ្ងៃ ៨ រោច ថ្ងៃពេញបូណ៌មី ថ្ងៃខែដាច់ ជាថ្ងៃសីល ។

---

# ៣៦.- វត្ត

វត្តនៅចុងភូមិ មានរបងបង្គោលឈើព័ទ្ធជុំវិញ ។ ព្រះវិហារសាងលើដីទួលធំមួយ រាងបួនជ្រុងទ្រវែង ។ នៅក្នុងវត្តមានកុដិលោកសង្ឃជាច្រើន សង់លើបង្គោលខ្ពស់ពីដី ។ នៅកណ្ដាលទីធ្លា មុខកុដិលោកគ្រូចៅអធិការ មានព្រះវិហារ ហើយនៅខាងស្ដាំ មានសាលាមួយធំសម្រាប់លោកឆាន់ ខាងឆ្វេងមានសាលាមួយទៀត សំរាប់ឧបាសកជើងវត្តមកប្រជុំគ្នាធ្វើបុណ្យ ។ បើចូលទៅក្នុងព្រះវិហារ គេឃើញព្រះពុទ្ធរូបធំមួយព្រះអង្គ ហើយនឹងព្រះពុទ្ធរូបតូច ៗ ជាច្រើនដាក់នៅសងខាងលើព្រះបល្ល័ង្ក ហើយនៅជិតខាងនោះ មានស្គរធំមួយ សំរាប់វាយប្រមូលឧបាសក ហើយនឹងលោកសង្ឃ កាលណាមានបុណ្យក្នុងវត្ត ។

នៅថ្ងៃសីល អស់ទាំងឧបាសកអ្នកកាន់សីលចូលទៅក្នុងវត្តស្ដាប់លោកសូត្រធម៌ ។

## ៣៣.– ចៅកេតបំរើលោកគ្រូ

រាល់ព្រឹក ចៅកេតភ្ញាក់ពីព្រលឹម ទៅដងទឹកដាក់ពាង ហើយ ដងទឹកប្រគេនលោកគ្រូលាងព្រះភក្ត្រ រួចចៅកេតបោសសំអាត លើកុដិ ក្រោមកុដិ រួចហើយ វាយកបាត្រនឹងបានស្រាក់មក ជូតឲ្យស្អាត ហើយដល់លោកគ្រូនិមន្តទៅបិណ្ឌបាត ចៅកេត យួរបានស្រាក់ដើរតាមលោកទៅ ។ អ្នកស្រុកប្រគេនសម្ល ត្រី សាច់ ហើយនឹងផ្លែឈើ ចៅកេតកាន់យ៉ាងល្អ មិនឲ្យធ្លាក់ កំពប់ឡើយ ។ លុះមកដល់កុដិហើយ ចៅកេតរៀបកន្លែង ប្រគេនលោកគ្រូគង់ ហើយលើកចង្ហាន់ប្រគេន ព្រមទាំង ថ្លៃលវ៉ា នឹងសំពត់ជូតព្រះហស្តផង ។ លោកគ្រូឆាន់រួចហើយ ទើបចៅកេតជញ្ជូនយកអាហារដែលសល់នោះមកបរិភោគ ។ លុះចៅកេតស៊ីបាយហើយ វាមកអង្គុយជិតលោកគ្រូ បំរើតាម ត្រៀបត្រា ។

ពាក្យពន្យល់ : លុបព្រះភ័ក្ត្រ = ពាក្យសម្រាប់និយាយនឹងលោកសង្ឃ មុននឹងស្ដេច ប្រែថាលាងមុខលុបមុខ ។ បាត្រ = ប្រដាប់ភាជនមូល របស់លោកសង្ឃ សម្រាប់ដាក់បាយ ។ ប្រគេន = ប្រែថា ឲ្យ ។ បិណ្ឌ = គឺអាហារចំណីលោកសង្ឃ ។

អក្សរផ្ចង់ : ចៅកេតដងទឹកប្រគេនលោកគ្រូ ។

# ភាគបន្ថែម

(សម្រាប់គ្រូ)

## សន្តានពាក្យ

ដែលហៅថា *សន្តានពាក្យ* គឺក្រុមពាក្យចេញមកអំពីពាក្យដើមតែមួយ ប៉ុន្តែបានសេចក្ដីផ្សេងពីគ្នា ឧបមាដូចពាក្យ *ផ្សើម សន្សើម* ជាសន្តានពាក្យចេញមកអំពីពាក្យ *សើម* ។ *អន្រែក សន្រែក* ជាសន្តានពាក្យចេញមកអំពីពាក្យ *រែក* ។

*

* *

## បទដើម (បុព្វបទ)

ដែលហៅថា *បទដើម* គឺព្យាង្គដើមផ្សំនឹងពាក្យដើមមួយ ឬ នឹងសំដីក្លាយពីពាក្យដើមមួយ កើតបានជាពាក្យថ្មីមួយទៀតពីរព្យាង្គ ឧបមាដូចក្នុងពាក្យ *បង្ហូរ* (បទដើម បង ផ្សំនឹងពាក្យដើម *ហូរ*) ។

*បំពេញ* (បទដើម *បំ* ផ្សំនឹងពាក្យដើម *ពេញ*) ។ *កំណាត់* បទដើម *កំ* ផ្សំនឹង *ណាត់* សំដីក្លាយពីពាក្យដើម *កាត់* ។

*

* *

កិរិយាសព្ទកើតពីកិរិយាសព្ទ ឬពីគុណនាមខ្លះ ដោយបទដើម

# បង បញ បណ បន បំ ។

មានកិរិយាសព្ទជាច្រើន ហើយនឹងគុណនាមខ្លះ យកបទដើម បង បញ បណ បន បំ កើតបានជាកិរិយាសព្ទថ្មីមួយទៀត ហើយបានក្នុងសេចក្តីថា «ធ្វើឲ្យ» ។

១១. បើកាលណាកិរិយាសព្ទ ឬគុណនាមដើមកើតដោយព្យញ្ជនៈ ក្នុងវគ្គ ក (គឺ ក ខ គ ឃ ង) ឬអវគ្គ (គឺ យ រ ល វ ស ហ) នោះ ប ទៅជាធាតុផ្តើម បង ។ ឧបមាដូចក្នុងពាក្យ៖

| | | | | |
|---|---|---|---|---|
| បង្កើត | បទដើម ឬព្យាង្គដើម | បង | ពាក្យដើម | កើត |
| បង្ខំ | ″ | | ″ | ខំ |
| បង្វៀន | ″ | | ″ | វៀន |
| បង្ហូរ | ″ | | ″ | ហូរ |
| បង្ហាត់ | ″ | | ″ | ហាត់ |
| បង្ហើរ | ″ | | ″ | ហើរ |
| បង្វិល | ″ | | ″ | វិល |

។ល។

១២. បើកាលណាកិរិយាសព្ទ ឬគុណនាមដើមកើតដោយអក្សរក្នុងវគ្គ ច (គឺ ច ឆ ជ ឈ ញ) នោះ ប ទៅជាបទដើម បញ ។ ឧបមាដូចក្នុងពាក្យ៖

| | | | | | | |
|---|---|---|---|---|---|---|
| បញ្ចេះ | បទដើម | ឬ | ព្យាង្គដើម | បញ | ពាក្យដើម | ចេះ |
| បញ្ចូល | | | " | | " | ចូល |
| បញ្ចោត | | | " | | " | ចោត |
| បញ្ឆិះ | | | " | | " | ឆិះ |
| បញ្ឆោរ | | | " | | " | ឆោរ |
| បញ្ឈប់ | | | " | | " | ឈប់ |
| បញ្ឈរ | | | " | | " | ឈរ |

ៗ ល ៗ

១៣,— បើកាលណាកិរិយាសព្ទ ឬ គុណនាមដើមកើតជាព្យញ្ជនៈក្នុងវគ្គ ដ (គឺ ដ ឋ ឌ ឍ ណ) នោះ ប ទៅជាធាតុដើម បណ ឬទៅជា ប្រ ឬ ផ ក៏មាន។

ឧបមាដូចក្នុងពាក្យ :

| | | | | | | |
|---|---|---|---|---|---|---|
| បណ្ដើរ | បទដើម | ឬ | ព្យាង្គដើម | បណ | ពាក្យដើម | ដើរ |
| បណ្ដុះ | | | " | | " | ដុះ |
| បណ្ដាប់ | | | " | | " | ដាប់ |
| ប្រដូច | បទដើម | ឬ | ព្យាង្គដើម | ប្រ | " | ដូច |
| ប្រដល់ | | | " | | " | ដល់ |
| ផ្ដួល | បទដើម | ឬ | ព្យាង្គដើម | ផ | " | ដួល |
| ផ្ដេក | | | " | | " | ដេក |

ៗ ល ៗ

១៤. — បើកាលណាកិរិយាសព្ទ ឬ គុណនាមដើមកើតដោយព្យញ្ជនៈក្នុងវគ្គ ត (តិ ត ថ ទ ធ ន) នោះ ប ទៅជាធាតុផ្ដើម បន ឲ្យមានឡើងក្នុងពាក្យ :

| | | | |
|---|---|---|---|
| បន្ត | បទដើម ឬ ពាក្យដើម បន | ពាក្យដើម | ត |
| បន្ទុប | " | " | ទុប |
| បន្ទុំ | " | " | ទុំ |
| បន្ថយ | " | " | ថយ |
| បន្ថែម | " | " | ថែម |
| បន្ដំ | " | " | ដំ |

។ ល ។

១៥. — បើកាលណាកិរិយាសព្ទ ឬ គុណនាមដើមកើតដោយអក្សរក្នុងវគ្គ ប (តិ ប ផ ព ភ ម) នោះ ប ទៅជាធាតុផ្ដើម បំ ឲ្យមានឡើងក្នុងពាក្យ.

| | | | |
|---|---|---|---|
| បំបៅ | បទដើម ឬ ពាក្យដើម បំ | ពាក្យដើម | បៅ |
| បំបែក | " | " | បែក |
| បំបាត់ | " | " | បាត់ |
| បំពាក់ | " | " | ពាក់ |
| បំភ្លឺ | " | " | ភ្លឺ |
| បំភ័យ | " | " | ភ័យ |

។ ល ។

*កិរិយាសព្ទកើតពីគុណនាម ឬពីកិរិយាសព្ទដូចគ្នាដោយដាក់ផ្ដើម ស្រៈ អំ (១) ។*

ពាក្យខ្មែរ ពេលណាគុណនាម ឬកិរិយាសព្ទណាមួយកើតដោយពួក *អក្សរគែងគត់* (តំផ្ញើជើង ៗ) ឬដោយពួកព្យញ្ជនៈព្រាវតួផ្ញើជើង ហើយបើផ្ទេរយកស្រៈ *អំ* (១) មកផ្សំនឹងព្យញ្ជនៈដែលបង្កើតគុណនាម ឬកិរិយាសព្ទនោះវិញ នោះកើតបានទៅជាកិរិយាសព្ទថ្មីមួយរូបទៀតមានពីរព្យាង្គ ជាក្នុងសេចក្ដី "ធ្វើឲ្យ" ឯជើងជាតមកជាព្យាង្គ ទី ២ ពីយកទាំងស្រៈនឹងអក្សរប្រកបមកផង ។

ឯក្នុងពួកផ្ញើជើងឯទៀតក៏ដូចគ្នា ប៉ុន្តែព្យាង្គដើមកិរិយាសព្ទថ្មី យកព្យញ្ជនៈខ្លួនខាងដើមក្នុងវគ្គ (*សិថិល*(១)) តាំង ។

ឧបមាដូចក្នុងពាក្យ :

| | | | |
|---|---|---|---|
| *គំរប់ = គម្រប់* | បទដើម ឬ ព្យាង្គដើម | គំ | ពាក្យដើម *គ្រប់* (គុណនាម) |
| *សំរួច = សម្រួច* | " | *សំ* | " *ស្រួច* " |
| *សំរេច = សម្រេច* | " | " | " *ស្រេច* " |
| *គំរឹម គម្រឹម ឬ ដំរឹម = ដម្រឹម* | " | គំ ឬ ដំ(២) | " *ត្រឹម* " |

(១) *សិថិល* គឺព្យញ្ជនៈសម្លេងស្រាលដូចជា *ក គ ច ជ* ។ល។

**ធនិត** គឺព្យញ្ជនៈសម្លេងខ្លាំង កើតអំពីសម្លេងសិថិលផ្សំនឹងសម្លេង *ហ* ដូចជា **ខ ឃ ឆ** *ឈ* ។ល។ (ក + ហ = ខ, គ + ហ = *ឃ*) ។

(២) ប្រើ គ ដូចគ្នានឹង ដ ។

| សំអាត | បទដើម ឬ ព្យាង្គដើម | សំ | ពាក្យផ្ដើម | ស្អាត | (គុណនាម) |
|---|---|---|---|---|---|
| តំរង់ = តម្រង់ ឬ ដំរង់ = ដម្រង់ | | " | " | ត្រង់ | " |
| តំរូវ = តម្រូវ ឬ ដំរូវ = ដម្រូវ | | " | " | ត្រូវ | " |
| សំរើប = សម្រើប | " | " | " | ស្រើប | " |
| សំដែង = សម្ដែង | " | " | " | ស្ដែង | " |
| សំរាល = សម្រាល | " | " | " | ស្រាល | " |
| លំអ | " | លំ | " | លម្អ | " |
| លំអិត | " | " | " | លម្អិត | " |
| ជំរះ = ជម្រះ | " | ជំ | " | ជ្រះ | " |
| ជំរុះ = ជម្រុះ | " | | " | ជ្រុះ | (កិរិយាសព្ទ) |
| ទំលាក់ = ទម្លាក់ | " | ទំ | " | ធ្លាក់ | " |

ៗលៗ

### នាមកើតពីកិរិយាសព្ទដោយធាតុផ្ដើមស្រៈ អំ (០)

១១. តាមធម្មតា បើកាលណាកិរិយាសព្ទកើតដោយព្យញ្ជនៈ សិថិល ហើយបើផ្លាស់យកស្រៈ អំ (០) មកផ្សំនឹងព្យញ្ជនៈនេះវិញ នោះកើតបានទៅជានាមពីរព្យាង្គ ព្រះដើមនឹង [illegible] របស់កិរិយាសព្ទ ដែលមកនៅឯព្យាង្គក្រោយរបស់នាមនេះវិញ ឯព្យាង្គក្រោយនេះតាំង [illegible] ណ ឬ ន តាមដោយព្យញ្ជនៈដែលបង្កើតកិរិយាសព្ទនោះជា អឃោសៈ ឬ ឃោសៈ ។

ឧបមាថ្លឹងក្នុងពាក្យ :

| តំណាក់ បទដើម ឬ ព្យាង្គដើម | តំ | ពាក្យដើម | តាក់ |
|---|---|---|---|
| កំណាត់ | . | . | កត់ |
| ចំណេះ | ចំ | . | ចេះ |
| ចំណុះ | . | . | ចុះ |
| ចំណែក | . | . | ចែក |
| ដំណាំ | ដំ | . | ដាំ |
| ដំណើរ | . | . | ដើរ |
| ដំណេក | . | . | ដេក |
| សំណូក | សំ | . | សូក |
| សំណែន | . | . | សែន |
| សំណើច | . | . | សើច |
| គំនិត | គំ | . | គិត |
| គំនូរ | . | . | គូរ |
| ជំនូន | ជំ | . | ជូន |
| កំណល់ | កំ | . | កល់ |

# សារបាញរឿង

## ភាគទី ១

ទំព័រ

## ភាគទី ២ ទំព័រ

ទំព័រ



## កាតបន្ថែម

